www.yerngshare.blogspot.com

គម្រោងបច្ចេកទេសពង្រាយបច្ចេកវិទ្យាដើម្បីបង្កើនផលិតភាពជុំវិញតំបន់ទន្លេសាប

( TSTD — TA 7305-CAM )

# បច្ចេកទេសដាំដំណាំ




ខែ សីហា ឆ្នាំ ២០១៣

www.telecentercambodia.org/

# អារម្ភកថា

គម្រោងបង្ហាញបច្ចេកវិទ្យាដើម្បីបង្កើនផលិតភាពជុំវិញតំបន់ទន្លេសាប (TSTD) ជាគម្រោងជំនួយ បច្ចេកទេស ដែលផ្តល់សហ-ហិរញ្ញប្បទានឥតសំណងសម្រាប់អនុវត្ត ដោយរដ្ឋាភិបាលហ្វាំងឡង់ដ៏ មូលនិធិដៃគូអ៊ី-អាស៊ី និង ចែករំលែកពុទ្ធិនៃសាធារណៈរដ្ឋកូរ៉េ និង ធនាគារអភិវឌ្ឍន៍អាស៊ី (អេឌីប៊ី) ។ រាជរដ្ឋាភិបាលកម្ពុជា ចូលរួមបដិភាគមិន មែនជាថវិកា (ធនធានមនុស្ស ការិយាល័យបំពេញការងារ...) សម្រាប់អនុវត្តគម្រោង។ ធនាគារអភិវឌ្ឍន៍អាស៊ី ជាអ្នក ចាត់ចែងប្រតិបត្តិការផ្ទាល់ ជំនួសមុខឲ្យម្ចាស់ជំនួយ ។ គម្រោង កំពុងធ្វើការសាក ល្បងបង្ហាញបច្ចេកវិទ្យាកសិកម្ម និង ផ្តល់សេវាព័ត៌មានជនបទ ដើម្បីបង្កើន និង ពង្រីកប្រាក់ប្រភពចំណូលរបស់គ្រួសារកសិករខ្នាតតូច ក្នុងខេត្ត កំពង់ចាម កំពង់ធំ សៀមរាប និង បន្ទាយមានជ័យ។

គម្រោងបានអនុវត្តកម្មវិធីធ្វើបង្ហាញបច្ចេកវិទ្យាផលិតកម្មដំណាំបន្លែ ក្នុង ខេត្តកំពង់ចាម និង ខេត្តកំពង់ធំ ដោយសហការជាមួយ ក្រុមហ៊ុនគ្រាប់ពូជបន្លែ អ៊ីស្តវេស្ទ៍ស៊ីដ អ៊ិនធើណេសិនណល (East West Seed International) ក្នុងរូបភាពកិច្ចសហការភាពជាដៃគូរសាធារណៈ-ឯកជន ។ អ្នកបច្ចេកទេសរបស់ក្រុមហ៊ុន បាន សហការជាមួយមន្ត្រីកសិកម្ម នៅតាមមូលដ្ឋានក្នុងខេត្តទាំងពីរ បានអនុវត្តកម្មវិធីធ្វើបង្ហាញ និងបណ្តុះបណ្តាល បច្ចេកទេសផលិតកម្មបន្លែ ដោយប្រើវិធីសាស្ត្របង្រៀនឱ្យធ្វើអនុវត្តជាក់ស្តែង (សាលារៀនបន្លែកសិករ) ជាជំហានៗ តាមដំណាក់កាលលូតលាស់ ពេញមួយវដ្តដំណាំ។

សៀវភៅណែនាំបច្ចេកទេសសម្រាប់កសិករ ស្តីពី ***បច្ចេកទេសម្រះ*** នេះ បានរៀបចំឡើងដើម្បីផ្តល់នូវ ចំណេះដឹង និង ចំណេះធ្វើជាក់ស្តែង ដល់គ្រួសារកសិករ ស្តីពី ការដាំដំណាំនេះ តាមបច្ចេកទេសថ្មី ដែលអាចដាំ បានគ្រប់រដូវ ពេញមួយឆ្នាំ។ បច្ចេកទេសថ្មីនេះ ជួយគ្រួសារកសិករ ឲ្យមានប្រភពចំណូលថ្មី ជាប្រចាំបន្ថែមមួយទៀត ដោយប្រើប្រាស់ឱ្យកាន់តែអស់លទ្ធភាពនូវធនធានដី-ទឹក និង ធនធានផ្សេងទៀតដែលគ្រួសារមាន ។

ខ្លឹមសារក្នុងសៀវភៅណែនាំបច្ចេកទេសសម្រាប់កសិករនេះ បានរៀបចំឡើងដោយក្រុមអ្នកបច្ចេកទេសអនុវត្ត របស់ក្រុមហ៊ុនគ្រាប់ពូជបន្លែ អ៊ីស្តវ៉េស្ទ៍ស៊ីដ សម្រាប់កសិករ ដោយផ្អែកលើជំហានអនុវត្តជាក់ស្តែង និង បទពិសោធន៍ ទទួលបានជោគជ័យក្នុងការដាំដំណាំនេះ រយៈពេលពីររដូវកន្លងមក នៅក្នុងខេត្តទាំងពីរ ។ ក្នុងការរៀបឯកសារនេះ មានការចូលរួមយ៉ាងសកម្ម ក្នុងការផ្តល់គំនិត និង ការសម្រួល និងបន្ថែមខ្លឹមសារបច្ចេកទេស ក៏ដូចជា ផ្នែករចនាបថ សរសេរ និង ប្រាស្រ័យទាក់ទងផ្សព្វផ្សាយ ការកត់ត្រាសំរាប់គ្រប់គ្រងកសិដ្ឋាន និង វិភាគសេដ្ឋកិច្ចផលិតកម្ម របស់ លោក **លីវ លាងហ៊ី** ប្រធានក្រុមទីប្រឹក្សាគម្រោង និង អ្នកជំនាញផ្នែកផ្ទេរ និង ផ្សព្វផ្សាយបច្ចេកវិទ្យា។

ការអនុវត្តន៍កម្មវិធីធ្វើបង្ហាញ និងបណ្តុះបណ្តាល ស្តីពី ***ការដាំដំណាំម្រះ*** តាមបច្ចេកទេសថ្មីនេះ អាចទទួល បានជោគជ័យ ដោយសារមានការគាំទ្រជាប់ជាបន្តពី ថ្នាក់ដឹកនាំ និង បុគ្គលិកក្រុមទីប្រឹក្សាគម្រោង ពី លោក **ប្រាក់ ថាវអមិដា** ប្រធានសម្របសម្រួលគម្រោង TSTD និង ជាអគ្គលេខាធិការរង នៃក្រសួងកសិកម្ម រុក្ខាប្រមាញ់ និង នេសាទ និង ពីមន្ទីរកសិកម្មខេត្ត ទាំងពីរ។

ខែ សីហា ឆ្នាំ ២០១៣

**<u>ទំនាក់ទំនងព័ត៌មានបន្ថែម</u>**

លោក លីវ លាងហ៊ី ប្រធានក្រុមទីប្រឹក្សា / អ្នកជំនាញផ្នែកផ្ទេរ និង ផ្សព្វផ្សាយបច្ចេកវិទ្យា នៃគម្រោង TSTD
អ៊ីម៉ែល : livleanghy@gmail.com

## **<u>១. ការរៀបចំដី</u>**

- សំអាតដីចំការ និង រើសស្មៅចេញឱ្យអស់។
- ភ្ជួរ រាស់ដីឲ្យបានម៉ដ្ឋល្អ ហើយហាលឱ្យបានពី១០ទៅ១៥ថ្ងៃ ។
- ភ្ជួរដី (គោក្របី ឬ គោយន្ត) ជម្រៅពី ១៥ ទៅ ២០ សង់ទីម៉ែត្រ។

<u>ការលើករងដាំ:</u>

- ទទឹងរង: ១ ម៉ែត្រ និង បណ្តោយទៅតាមលទ្ធភាពដី តែមិនគួរឲ្យលើពី ១៥ ម៉ែត្រ ដែលធ្វើឲ្យពិបាកក្នុងការថែទាំ ដូចជាស្រោចទឹកដក ស្មៅជាដើម។
- កំពស់: នៅរដូវប្រាំង ពី២០ ទៅ៣០សង់ទីម៉ែត្រ និង នៅរដូវវស្សា ពី៣០ ទៅ ៥០ សង់ទីម៉ែត្រ
- ដាក់លាមកសត្វស្ងួត ឬ ជីកំប៉ុស្ដិ៍ ក្នុងបរិមាណពី ១ ទៅ ២ គីឡូក្រាម ក្នុងផ្ទៃដីរង១ ម៉ែត្រការ៉េ កប់ទ្រាប់បាតរងដោយច្របល់វាឲ្យសព្វល្អជាមួយដីរង។ (*សូមមើលតារាងប្រើប្រាស់ជី នៅទំព័រខាងមុខ)*
- គ្របរងដាំ: ធ្វើបានពីរប្រភេទដើម្បីទប់ស្កាត់ការហូរច្រោះរង ការពារសំណើមដី កាត់បន្ថយការដុះស្មៅ។




១. ប្រើខ្សែទាញតំរង់ដើម្បីចោះរណ្ដៅដាំកូន និង ខ្នាតសម្រាប់ចោះរណ្ដៅ ពីគុម្ពមួយទៅគុម្ពមួយ (មើលទំព័របន្ទាប់)

២. ប្រើកំប៉ុងក្ដៅសំរាប់ចោះរណ្ដៅ

៣. រៀបចំទ្រើង សំណាញ់ឲ្យហើយ និងបញ្ជូលទឹកតាមចន្លោះរង  មុនពេលដាំកូនម្រះ។

ខ. លើករងប្រើចំបើងគ្រប



១. ដាក់ជីទ្រាប់បាត ហើយស្រោចទឹកទើបគ្របចំបើង



២. ដាំកូនបន្លែ រួចទើបស្រោចទឹកបន្ថែមឱ្យជោគ




## ២. ការធ្វើរានបណ្តុះកូន

ការធ្វើរោងបណ្តុះកូនបន្លែ គឺអាចធ្វើឱ្យគ្រាប់ដុះបានល្អ កាត់បន្ថយការលួយកូន និង អាចការពារកូនដំណាំបានពីការឆ្លងជម្ងឺពី សត្វល្អិតចង្រៃ (ដែលមកយាយីកូនដំណាំ)។ រោងបណ្តុះកូនបន្លែ អាចធ្វើតាមទំហំខាងក្រោម៖

- ដំបូលសំរាប់គ្របរាន: កំពស់ ពី១,៨ ទៅ ២ ម៉ែត្រ ដើម្បីងាយស្រួលចេញចូលថែទាំកូនម្រុះ។
- កំពស់រាន: ពី 0,៨ ទៅ ១ម៉ែត្រ ពីដី
- ទទឹងរាន: ពី 0,៨ ទៅ ១ម៉ែត្រ
- មានដំបូលការពារទឹកភ្លៀង និងសំណាញ់ការពារពន្លឺថ្ងៃ (ជាការប្រសើរ ប្រើសំណាញ់មានពណ៌បៃតង)
- មានជញ្ជាំងធ្វើពីសំណាញ់មុង ការពារសត្វល្អិត។



## ៣. ការរៀបចំដីបណ្ដុះកូន

- យកដីមានជីជាតិ ១ ភាគលាយជាមួយជីលាមកគោស្ងួត ឬជីកំប៉ុស្តិ៍ ២ ភាគ និង ផេះអង្កាម ពី២ ទៅ ៣ភាគ (ផេះអង្កាមត្រូវត្រាំទឹក រយៈពេលពី៣ ទៅ ៤យប់)
- យកល្បាយដែលបានលាយច្របល់ហើយយកទៅលីងរហូតក្ដៅសព្វទាំងអស់

*ផលប្រយោជន៍ការលាយល្បាយដី សម្រាប់បណ្ដុះកូន គឺ ៖*

- គ្រាប់ងាយដុះ ឬសដុះលូតលាស់ល្អ
- កូនបន្លែស្រូបយកជីជាតិបានគ្រប់គ្រាន់
- សម្លាប់មេរោគ(ជម្ងឺ) ដែលបង្កឲ្យកូនបន្លែរលួយ
- សម្លាប់គ្រាប់ស្មៅចង្រៃដែលដុះដណ្ដើមយកជីជាតិពីកូនបន្លែ
- សម្លាប់ពង និង សត្វល្អិតចង្រៃក្នុងដីដែលបំផ្លាញគ្រាប់បន្លែ

- យកដីដែលលីងហើយ ទុកឲ្យត្រជាក់សិន ទើបដាក់ក្នុងកន្ទោង ឬ ថាសបណ្ដុះ




យកដីបណ្ដុះលីងហើយ  ដាក់ក្នុងកន្ទោង ឬ ថាសបណ្ដុះ




## ៤. ការរៀបចំបណ្តុះកូនម្រះ

- ត្រូវរៀបចំបណ្តុះគ្រាប់ ព្រមពេលជាមួយគ្នានឹងការលើករងដាំ
- ការបណ្តុះកូនអាចធ្វើបានពីរបែប៖

### ៤.១. បណ្តុះគ្រាប់ជាមុន

- ផ្តាប់គ្រាប់រយៈពេលពី១ ទៅ ២យប់ ទើបយកគ្រាប់ទៅបណ្តុះក្នុងកន្ទោង
- យកគ្រាប់ទៅពង្រាយដាក់ក្នុងក្រណាត់ស្បៃជក់ទឹក រួចរុំគ្រាប់ឲ្យបានហប់ល្អ
- ស្រោចទឹកជារៀងរាល់ថ្ងៃឲ្យក្រណាត់ស្បៃសើម





ខ្ចប់គ្រាប់ឱ្យហប់ ផ្តាប់ពី១ ទៅ ២យប់

១. ពង្រាយគ្រាប់លើក្រណាត់សើមស្អាត

- ជ្រើសរើសយកគ្រាប់បែកមាត់ ដាក់១គ្រាប់ ក្នុងមួយកន្ទោង ឬ ១ រន្ធថាសបណ្តុះ កប់គ្រាប់ជំរៅ ១ សង់ទីម៉ែត្រ (កន្លះថ្នាំងដៃ)។ បើកប់គ្រាប់ជ្រៅ ឬ រាក់ពេក អាចធ្វើឲ្យគ្រាប់មិនអាចដុះបានល្អ
- រោយដីស្តើងៗពីលើវា ហើយបាញ់ទឹកលើថាសឲ្យជោគ
- យកកន្ទោង ឬ ថាសបណ្តុះដាក់គ្រាប់ហើយ ទៅដាក់ក្នុងរោងបណ្តុះ
- ស្រោចទឹករៀងរាល់ពេលព្រឹកឲ្យជោគល្មម (អាចពី១ ទៅ២ដង ក្នុង ១ថ្ងៃ អាស្រ័យតាមស្ថានភាពដី) ។ បើសិនដីស្ងួតពេក អាចធ្វើឲ្យគ្រាប់មិនដុះ។



២. ដាក់គ្រាប់ក្នុងថាសបណ្តុះ



៤. យកថាសបណ្តុះដាក់ក្នុងរោងបណ្តុះ



៣. រោយដីបណ្តុះពីលើគ្រាប់ទើបស្រោចទឹក



១. ដាក់គ្រាប់ក្នុងថាសបណ្ដុះ

### ៤.២. បណ្ដុះគ្រាប់ដោយផ្ទាល់ (មិនចាំបាច់ផ្ទាប់គ្រាប់)

- យកគ្រាប់ចំនួន១គ្រាប់ដាក់បណ្ដុះក្នុងកន្ទោង ឬ ១ រន្ធថាសបណ្ដុះ កប់គ្រាប់ជំរៅពី ១ ទៅ ២ សង់ទីម៉ែត្រ។
- រោយដីស្ដើងៗពីលើវា ហើយបាញ់ទឹកលើថាសឲ្យជោគ
- ស្រោចទឹកឲ្យជោគ ទើបយកថាស ឬ កន្ទោងដែលដាក់គ្រាប់ ហើយ ទៅដាក់ក្នុងរោងបណ្ដុះ។
- ស្រោចទឹករៀងរាល់ពេលព្រឹកឲ្យជោគ (អាចពី១ ទៅ ២ដងក្នុង ១ ថ្ងៃ អាស្រ័យតាមស្ថានភាពដី) បើសិនដីស្ងួតពេក អាចធ្វើឲ្យគ្រាប់មិនដុះ។



៣. យកថាសបណ្ដុះដាក់ក្នុងរោងបណ្ដុះ



២. រោយដីបណ្ដុះពីលើគ្រាប់ទើបស្រោចទឹក

## ៥. ការដាំកូនម្រះ

- បន្ទាប់ពីគ្រាប់ម្រះដុះបានរយៈពេលពី ៣ ទៅ៤ថ្ងៃ  អាចយកកូនទៅដាក់ឱ្យត្រូវពន្លឺថ្ងៃ ដើម្បីពង្រឹងកូនមុនពេលដាំ (មិនស្រពោន បន្ទាប់ពីដាំហើយ)
- កាត់បន្ថយការស្រោចទឹក រយៈពេល ពី២ ទៅ ៣ថ្ងៃ មុននឹងយកកូនម្រះទៅដាំ។
- កូនម្រះអាយុបាន៧ថ្ងៃ បន្ទាប់ពីដុះគ្រាប់ អាចយកដាំបាន។

ពង្រឹងកូនម្រះ ដោយដាក់ឱ្យត្រូវពន្លឺថ្ងៃ (ពង្រឹងកូន មុនដាំ)





- បញ្ចូលទឹកតាមចន្លោះរងសំរាប់រងដាំគ្របប្លាស្ទិច (បើស្រោចដោយដៃ ក្នុងរណ្ដៅរងគ្របប្លាស្ទិចអាចបណ្ដាលឲ្យកូនបន្លែស្លោកស្រពោន បន្ទាប់ពីដាំកូនហើយ) ឬ ស្រោចទឹកលើរងដែលគ្របចំបើង ។



១. បញ្ចូលទឹកតាមប្រលោះរងនៅពេលព្រឹក ដាំកូនបន្លែនៅពេលរសៀល



២. ច្របល់ជីគីមីក្នុងរណ្ដៅជំរៅ១០ សង់ទីម៉ែត្រ បើសិនមិនបានដាក់មុនពេលគ្របប្លាស្ទិច ឬ ចំបើង

- ដាក់ជីគីមីតាមរណ្ដៅច្របល់ជាមួយដីឲ្យសព្វ (បើបានដាក់ជីមុនពេលគ្របប្លាស្ទិច ឬ ចំបើងហើយមិនចាំបាច់ដាក់ជីថែមទៀតទេ)
- ដាំកូនម្រះនៅពេលរសៀល
- របៀបដកកូនបន្លែចេញពីថាសបណ្ដុះ គឺយកម្រាម រុញបាតថាសឡើងលើ ហើយដៃម្ខាងទៀតដកកូនម្រះថ្នមៗ ដើម្បីកុំឲ្យដាច់ឫសកូនម្រះ។
- ត្រូវដាំកូនបន្លែត្រឹម *ដីកំណើត* ជៀសវាងកប់កូនបន្លែលិចគល់វា។





ដាំកូនម្រះ ត្រឹម *ដីកំណើត*



របៀបដកកូនចេញពីថាសបណ្ដុះ

## ៦. ការថែទាំ

### ៦.១ ការដាក់ជីគីមីបំប៉ន

ពូជម្រះបង្កាត់ (អ៊ីប្រីត) ត្រូវដាក់ជីគីមី និង ស្រោចទឹកឲ្យទៀងទាត់ទើបផ្ដល់ផ្លែផ្កា បានច្រើន។ ពេលវេលា និង បរិមាណជីត្រូវដាក់ គឺ អាស្រ័យទៅតាមប្រភេទដី។ ដាក់ជីបំប៉នចន្លោះពី ៧ ទៅ ១៥ថ្ងៃម្ដង បន្ទាប់ពីដាំកូនបន្លែហើយ គឺអាស្រ័យតាមប្រភេទដី។ ចំពោះដីខ្សាច់ ត្រូវដាក់ជីឱ្យញឹកញាប់ តែបរិមាណតិចជាងដីមានល្បាយច្រើនជាងខ្សាច់។ ដាក់ជីហើយ ត្រូវស្រោចទឹក ដោយបញ្ចូលតាមចន្លោះរង ។ (ជៀសវាងដាក់ជីគីមី នៅពេលថ្ងៃក្ដៅ)។

## បរិមាណ និង ពេលវេលាការដាក់ជីសំរាប់ម្រះពូជបង្កាត់

| ពេលវេលាដាក់ជី | ប្រភេទជី | បរិមាណជី | កន្លែងដាក់ជី |
|---|---|---|---|
| មុនពេលដាំ ១៥ថ្ងៃ | ជីសរីរាង្គ (លាមកសត្វ ដែលពុកផុយ ឬ កំប៉ុស្ដិ៍) | ១-២ គីឡូ ក្នុង ១ ម៉ែត្រការ៉េ | កប់ជីកណ្ដាលរង (ពេលរៀបចំរងដាក់គម្របរង) |
| មុនដាំពី៥ ទៅ ៧ថ្ងៃ (បន្ទាប់ពីចោះរង) | ជី ២០-២០-១៥ | ៥ក្រាម (១ កម្រឋបដបទឹកសុទ្ធតូច) ក្នុង ១គុម្ព | បុកកប់កណ្ដាលរណ្ដៅ (មុនដាំ ពី៥ ទៅ ៧ ថ្ងៃ) |
| ក្រោយដាំកូនបាន ៧ថ្ងៃ | ជី ៤០-០-០ | ៥ ក្រាម ក្នុង ១គុម្ព (២ រន្ធសងខាងគុម្ព) | កប់ជីចំងាយគល់ពី ៨ ទៅ ១៥ សង់ទីម៉ែត្រ (សងខាងគុម្ព) |
| ក្រោយដាំកូនបាន ១៤ថ្ងៃ | ជី ២០-២០-១៥ | ៥ ក្រាមក្នុង ១គុម្ព (១ រន្ធ ១គុម្ព) | កប់ជីចំងាយគល់ពី ១៨ ទៅ ២៥ សង់ទីម៉ែត្រ |
| ក្រោយដាំកូនបាន ២១ ថ្ងៃ | ជី ២០-២០-១៥ | ៥ ក្រាមក្នុង ១គុម្ព (១ រន្ធ ១គុម្ព) | កប់ជីចំងាយគល់ពី ១៨ ទៅ ២៥ សង់ទីម៉ែត្រ |
| ក្រោយដាំកូន ២៨ ថ្ងៃ | ជី ០-០-៦០<br>ជីបំប៉នបាញ់ផ្លែផ្កា (ជី ១១-៩-៤០) | ៥ ក្រាមក្នុង ១គុម្ព<br>៥០ក្រាមទឹក១៦លីត្រ (ជី ៥០០ ម៉ែត្រការ៉េ) | កប់ជីចំងាយគល់ពី ១៨ ទៅ ២៥ សង់ទីម៉ែត្រ<br>បាញ់លើស្លឹក ដើម ផ្កា |
| ក្រោយដាំកូន ២៨ ថ្ងៃ | ជី ០-០-៦០ និង<br>ជី ២០-២០-១៥ | ៥ ក្រាមក្នុង ១គុម្ព<br>៥ ក្រាមក្នុង ១គុម្ព | កប់ជីចំងាយគល់ពី ១៨ ទៅ ២៥ សង់ទីម៉ែត្រ |
| ក្រោយដាំកូនបាន ៣៥ថ្ងៃ | ជី ០-០-៦០ លាយ<br>ជី ១៦-២០-០ | ៥ ក្រាមក្នុង ១គុម្ព (១ រន្ធ ១គុម្ព) | កប់ជីចំងាយគល់ពី ១៨ ទៅ ២៥ សង់ទីម៉ែត្រ |
| ក្រោយដាំកូនបាន ៤៣ថ្ងៃ | ជី ០-០-៦០ និង<br>ជី ១៦-២០-០ | ៥ ក្រាមក្នុង ១គុម្ព<br>៣ ក្រាមក្នុង ១គុម្ព | កប់ជីចំងាយគល់ពី ១៨ ទៅ ២៥ សង់ទីម៉ែត្រ (១ រន្ធ ១គុម្ព) |
| ក្រោយដាំកូនបាន ៥១ថ្ងៃ | ជី ០-០-៦០ លាយ<br>ជី ១៦-២០-០ | ៥ ក្រាមក្នុង ១គុម្ព | កប់ជីចំងាយគល់ពី ១៨ ទៅ ២៥ សង់ទីម៉ែត្រ (១ រន្ធ ១គុម្ព) |
| ក្រោយដាំកូនបាន ៦០ថ្ងៃ | ជី ០-០-៦០ | ៥ ក្រាមក្នុង ១គុម្ព (១ រន្ធ ១គុម្ព) | កប់ជីចំងាយគល់ពី ១៨ ទៅ ២៥ សង់ទីម៉ែត្រ |

## របៀបដាក់ជីគីមី

### ក. ទីតាំងដាក់ជីបំប៉ន

- រងគ្របប្លាស្ទិច ឬ គ្របចំបើង ត្រូវយកឈើបុករណ្ដៅ សងខាងគុម្ព ទើបដាក់ ជី ។
- ដាំកូនបន្លែបានរយៈពេល២ អាទិត្យត្រូវដាក់ជីចំងាយ ១០ សង់ទីម៉ែត្រ (១ តឹក)ពីគល់
- ដាំកូនបានរយៈពេល៤អាទិត្យ ត្រូវដាក់ជីចំងាយ ពី ១៨ ទៅ ២៥ សង់ទីម៉ែត្រ ពីគល់។
- ដាំកូនបានលើសពី៦អាទិត្យ ត្រូវដាក់ជីនៅចនោះ



## ខ. ពេលវេលាដាក់ជីបំប៉ន

ដាក់ជីបំប៉នឱ្យទៀងទាត់រវាងពី៧ ទៅ ១៥ថ្ងៃម្តង បន្ទាប់ពីដាំកូនបន្លែហើយ គឺ អាស្រ័យតាមប្រភេទដី។ ចំពោះដីខ្សាច់ ត្រូវដាក់ជីឱ្យញឹកញាប់ តែបរិមាណតិចជាងដីមានល្បាយច្រើនជាងខ្សាច់។ ដាក់ជីហើយត្រូវស្រោចទឹក (ជៀសវាងដាក់ជីគីមី នៅពេលថ្ងៃក្តៅ)។

## ៦.២ ការស្រោចទឹក

- ត្រូវស្រោចទឹកនៅពេលព្រឹក ដោយបញ្ចូលទឹកតាមចន្លោះរង។ បើស្រោចទឹកពេលថ្ងៃត្រង់ ឬ ពេលល្ងាច(ដីសើមនៅពេលយប់) អាចធ្វើឲ្យម្រះមានបញ្ហាដូចជា រលួយ ឬ រលាកដើម។
- ស្រោចទឹកឲ្យបានទៀងទាត់ មិនត្រូវឲ្យដីស្ងួតជាពិសេសបន្ទាប់ពីដាំកូនហើយ ។ ពីព្រោះកូនដំណាំ ត្រូវការទឹកជីសំរាប់ដុះលូតលាស់ ឬស ដើម ស្លឹក ផ្កា ផ្លែ។
- បើពិនិត្យឃើញនៅក្បែគល់ស្ងួត (*មិនអាចលុញជាដុំមូលបាន*)ត្រូវស្រោចទឹកបន្ថែម ។ បើដីនៅក្បែរគល់ម្រះសើមខ្លាំង (*ច្របាច់ដីមានទឹកហៀរតាមម្រាមដៃ*) មិនត្រូវដាក់ទឹក បន្ថែមទេ ។ ទឹកដក់ច្រើនពេក ធ្វើឲ្យម្រះរលួយឬស ឬ ងាប់ដើមបាន។

## ៦.៣ ការកាត់តែងមែក

ក្រោយពីដាំម្រះបានពី១៥ ទៅ ២០ថ្ងៃ យើងអាចកាត់ខ្នែង ដែលបែកចេញពីដើមមេ ។ រក្សាតែដើមមេមួយប៉ុណ្ណោះ រហូតដល់ដើមមេ មានកំពស់ ពី៧០ ទៅ១០០សង់ទីម៉ែត្រ ទើបយើងអាចរក្សាទុកខ្នែងបាន ។ យើងអាចកាត់ខ្នែង រៀងរាល់៧ថ្ងៃម្តង។ ផលប្រយោជន៍កាត់ខ្នែងខាងក្រោមៗចេញ គឺ ធ្វើឱ្យដើមមេ ដុះលូតលាស់បានលឿន ផ្តល់ផ្លែបានធំស្មើគ្នា។


ដើមម្រះ ដែលបានកាត់ខ្នែង ផ្នែកក្រោមៗ ចោល

## ៦.៤ ការជំរះស្មៅចង្រៃ

ត្រូវជំរះស្មៅឲ្យបានស្អាត ទោះបីជារងគ្របចំបើង ឬ ប្លាស្ទិចគ្របដីក៏ដោយ ។ ស្មៅនៅតាមចន្លោះរង ត្រូវដកចេញ ពីព្រោះវាជាជំរកសត្វល្អិតចង្រៃបំផ្លាញ ហើយក៏ជាភ្នាក់ងារចំលងជម្ងឺដល់ដំណាំ ផងដែរ។

# ៧. ជម្ងឺ និងសត្វល្អិតចង្រៃ

## ៧.១ ជម្ងឺទុំលឿងស្លឹក

វាកើតមានលើស្លឹកដែលយើងអាចសង្កេតឃើញមានចំណុចអុច ពណ៌លឿងរាងជ្រុង ហើយដុំពណ៌នេះប្រែជាពណ៌ត្នោត។ នៅពីក្រោមផ្ទៃស្លឹកមានដុំដាំស្លឹករាងជ្រុងៗ។





## វិធានការការពារ និង កំចាត់

| ការកំចាត់ជម្ងឺទុំលឿងស្លឹក | ការការពារជម្ងឺទុំលឿងស្លឹក |
|---|---|
| ១. បេះស្លឹកជម្ងឺចេញពីដើមដោយដៃ ឬ ឧបករណ៍សំរាប់កាត់ (កូនកាំបិត កន្ត្រៃ)រួចយកស្លឹកនេះទៅកប់។<br>២. បាញ់ថ្នាំមេតាឡាក់ស៊ីល (Metalaxyl) ដោយឆ្លាស់គ្នាជាមួយថ្នាំម៉ង់កូហ្សេប (Mancozeb) នៅពេលថ្ងៃល្ងាច<br>៣. កុំស្រោចទឹកជោគជាំពេក | ១. ពង្រីកចន្លោះជួរ និង គុម្ពដាំម្រះ<br>២. កំចាត់ស្មៅចង្រៃ និងដំណាំអត់ប្រយោជន៍<br>៣. បេះស្លឹកទើបចាប់មានរោគសញ្ញាជម្ងឺ ចេញ រួចយកស្លឹកនេះទៅកប់។<br>៤. បាញ់ថ្នាំមេតាឡាក់ស៊ីល (Metalaxyl) ឬ ហ្វូសេទីល-អាល់ (Fosetyl-Al) ការពារជម្ងឺក្នុងតំបន់ដែលមានសំណើមខ្លាំង។ |

សំគាល់៖ ត្រូវបាញ់ថ្នាំផ្សិត រវាងពី៥ទៅ៧ថ្ងៃម្តង ដោយបាញ់នៅពេលថ្ងៃល្ងាច។ ថ្នាំផ្សិតត្រូវបាញ់ពីខាងក្រោម និងខាងលើផ្ទៃស្លឹក។ ជាការប្រសើរ ត្រូវលាយថ្នាំ ជាមួយទឹកស្អិតដើម្បីឱ្យថ្នាំនៅជាប់នឹងស្លឹកបានយូរ។

## ៧.២ ស្រាំងទិចផ្លែ

ស្រាំង ជាប្រភេទសត្វល្អិត ដែលទិចផ្លែបញ្ចូលពងទៅក្នុងក្តិបផ្លែម្រះ បន្ទាប់មកវាក្លាយទៅជាកូនដង្កូវញាស់ក្នុងផ្លែ ដែលបណ្តាលឲ្យផ្លែម្រះទុំមុនពេលប្រមូលផល ហើយរលួយ។



មេស្រាំងទិចផ្លែម្រះ



ផ្លែម្រះដែលបំផ្លាញដោយស្រាំងទិចផ្លែ

**វិធានការការពារ**

- ត្រូវ រុំ (ខ្ចប់) ក្តិបម្រះ ជាបន្ទាន់ (ដោយប្រើថង់ប្លាស្ទិច ឬ ក្រដាស) នៅពេលផ្កាក្តិបម្រះចាប់ផ្តើមស្រពោន។
- ត្រូវបេះផ្លែដែលខូចៗ ចេញហើយយកទៅកប់ចោលក្នុងដី ឬ ដុតចោល (ដើម្បីសំលាប់ដង្កូវស្រាំងក្នុងផ្លែខូច)។
- ប្រើនុយអន្ទាក់ ហ្វេរ៉ូមូនញី សំរាប់ទាក់ទាញស្រាំងឈ្មោលនៅជុំវិញចំការ។ នៅពេលស្រាំងឈ្មោលចូលក្នុងអន្ទាក់ហើយ យើងត្រូវប្រមូលវាចេញពីអន្ទាក់ ឱ្យបានញឹកញាប់។



ច្រកក្តិបម្រះដោយថង់ ឬ ក្រដាស់ដើម្បីការពារស្រាំងទិចផ្លែ



ប្រើនុយអន្ទាក់ *ហ្វេរ៉ូមូន* ចាប់ស្រាំងឈ្មោល៖

- យើងអាចប្រើដបទឹកសុទ្ធ ឬ កំប៉ុងជ័រ ចោះរន្ធទំហំប៉ុនម្រាមដៃចំនួនពីរ នៅផ្នែកខាងលើ។
- ចោះខ្សែលួសសំរាប់ដាក់នុយអន្ទាក់ *ហ្វេរ៉ូមូនញី* ក្នុងកំប៉ុង
- ដាក់កំប៉ុងចំនួនពី៣ ទៅ៤ ក្នុងផ្ទៃដី ចំនួ៥០០ ម៉ែត្រការ៉េ
- ត្រូវផ្លាស់ប្តូរនុយរវាងពី៥ ទៅ ៧ថ្ងៃ ម្តង

**៧.៣ ចៃ**

ត្រូវពិនិត្យរកមើលចៃ ឲ្យបានញឹកញាប់ នៅផ្នែកខាងក្រោមស្លឹក។ ចៃជាភ្នាក់ងារចម្លងជម្ងឺ វីរ៉ុស ដែលបណ្តាលឲ្យស្លឹក និងត្រួយម្រះ រួញ។



**វិធានការកំចាត់**

- កាត់ស្លឹកដែលមានចៃយកទៅកប់-ដុតចោល ឬ ញោចចៃដោយដៃ
- ប្រើថ្នាំពុលកសិកម្ម៖
    - អាបាមិចទីន (Abamectin)
    - ឌីណូតីហ្វូរ៉ង់ (Dinotefuran)
    - ហ្វីព្រូនីល (Fipronil)

សំគាល់៖

- មិនត្រូវយកថ្នាំពុលកសិកម្មលាយចូលគ្នាច្រើនមុខសំរាប់បាញ់ទេ (ថ្នាំអាចមានប្រតិកម្មជាមួយគ្នា ធ្វើឲ្យមិនមានប្រសិទ្ធិភាព)។
- ត្រូវជ្រើសរើសយកក្បាលបាញ់ទុយយោបាញ់ ដែលមានលក្ខណៈសាចល្អ ទើបថ្នាំនៅជាប់នឹងដើមស្លឹកបន្លែ
- ត្រូវប្រើទឹកស្អិតលាយជាមួយថ្នាំនៅពេលបាញ់ថ្នាំ

## ៨. ការប្រមូលផល




- ទំហំផ្លែម្រះបេះទៅតាមតំរូវការទីផ្សារ
- ត្រូវបេះផ្លែនៅពេលព្រឹក ដោយប្រើកន្ត្រៃកាត់ទង បេះផ្លែដាក់ក្នុងសម្ភារៈដែលមានផ្ទៃរលោង ដើម្បី ជៀសវាងការកកិត និងជាំផ្លែ ។

- ដើម្បីរក្សាគុណភាពបន្លែបានល្អ លក់បានថ្លៃយើងត្រូវ៖
  - ធ្វើចំណាត់ថ្នាក់គុណភាពផ្លែម្រះ ជា លេខ ១, ២, ៣
  - ច្រកម្រះក្នុងថង់ដែលមានបរិមាណ( ទំហំ) សមស្រប និង មាន គុណភាពស្វិតទន់។
  - ថង់ត្រូវចោះរន្ធតូចៗ ដើម្បីឲ្យខ្យល់ចេញចូលបាន កុំឱ្យ ស្អោកផ្លែម្រះ ។ ជៀសវាងច្រកបន្លែច្រើនហួសបរិមាណ ។
  - ហាមប្រើសម្ភារៈគ្មានខ្យល់ចេញចូល ព្រោះវាធ្វើឲ្យខូចគុណភាពផ្លែម្រះ (ទន់ ប្រែពណ៌លឿង ហើយ ងាយរលួយ)។





ធ្វើចំណាត់ថ្នាក់ផ្លែម្រះ



ច្រកម្រះតាមបរិមាណត្រឹមត្រូវ
ដើម្បីរក្សាគុណភាពម្រះ

## ៩. ការកត់ត្រាចំណាយចំណូលផលិតកម្ម និង វិភាគសេដ្ឋកិច្ច

### ៩.១. ការកត់ត្រាចំណាយចំណូលផលិតកម្ម

ការកត់ត្រាទុកនូវតួលេខន៍ចំណាយចំណូល មានសារៈសំខាន់ណាស់ ។ មាន ហេតុផលជាច្រើន ដែលគេចាំបាច់ត្រូវកត់ត្រាជាប្រចាំ ពីចំណាយចំណូលផលិតកម្ម ។ ហេតុផលចំបងមួយចំនួន មានដូចជាៈ

ប្រសិនបើគ្មានការកត់ត្រាពីអ្វីដែលត្រូវបានចំណាយ ហើយអ្វីដែលបានចំណូលនោះទេ យើងនឹងមិនអាចដឹងបានទេ ថាតើ មុខជំនួញ (ដូចជា *ការដាំបន្លែ*) របស់យើង ខាត ឬ ចំណេញ? ចូរចងចាំថា *ការទទួលបានប្រាក់ចំណូលរាល់ថ្ងៃ មិនមានន័យថា យើងបានទទួលប្រាក់ចំណេញនោះទេ* ។

ប្រសិនបើយើងដឹងច្បាស់ពីមុខចំណាយ និង មុខចំណូលច្បាស់លាស់ យើងអាចរិះរកវិធីដើម្បី គ្រប់គ្រងជំនួញឲ្យបានកាន់តែល្អ កាន់តែបានចំណេញច្រើន។

កំណត់ត្រាអាចត្រូវប្រើប្រាស់សម្រាប់ធ្វើផែនការចំណាយនៅពេលអនាគត ពីព្រោះយើងអាចដឹងពីតំលៃ និងធនធានដែលត្រូវចំណាយ ។

គោលដៅចំបងនៃធ្វើជំនួញ ឬ ផលិតកម្មអ្វីមួយ គឺរកបានចំណេញ និង កាន់តែចំណេញច្រើន ។ ប្រាក់ចំណេញ ជា <u>ផលសង (ឬ គម្លាតខុសគ្នាជាវិជ្ជមាន)</u> រវាង ប្រាក់ចំណូល (បានមកពីការលក់ផលិតផល ឬ សេវាកម្ម) និង ប្រាក់ចំណាយទាំងអស់ ។ ចំណាយ អាចបែងចែកជា ២ ប្រភេទ គឺ ៖

(១) <u>ចំណាយថេរ</u> (មិនប្រែប្រួល*) គឺជា ចំណាយមូលធន ដែលប្រើមួយសារមិនខូច ឬ មិនអស់ ដូចជា ដី សំណង់ ឃ្លាំង សម្ភារៈសាងសង់ទ្រើងត្រសក់ ធុងស្រោច ម៉ាស៊ីនបូមទឹក ប្រព័ន្ធស្រោចស្រពដំណក់ទឹក រោងបណ្តុះផ្សិត ទ្រុងមាន់ គ្រឿងចក្រ...... ដែលមានតំលៃ (ត្រូវកាត់រំលស់) ជាប្រចាំ ទោះជាមានការផលិត ឬក៏ គ្មានការផលិតក៏ដោយ ។ ដោយសារឧបករណ៍ និង សម្ភារៈ ក្នុងមុខចំណាយ*មិនប្រែប្រួល* ទាំងនេះ អាចប្រើបានច្រើនដង (ប្រើម្តងមិនអស់) ហើយ អាចប្រើនៅក្នុងផលិតកម្ម សារក្រោយៗ បានទៀតនោះ គេត្រូវគិតរំលស់វា ជាច្រើនសារ/ដង ។ ការកំណត់ចំនួនសាររំលស់ថ្លៃឧបករណ៍ និង សម្ភារៈ ក្នុងប្រភេទចំណាយថេរនេះ អាចគិតបានច្រើនបែប ដូចជា តាមចំនួនសារ (ដង) ផលិតកម្ម តាមអាយុកាល (រយៈពេល) អាចនៅប្រើបានរបស់វា ...... ។

* *មិនប្រែប្រួល* បានន័យថាៈ នៅពេលទិញ ឬ សាងសង់ហើយ (គឺថា បានចំណាយហើយ) ទោះបីបានប្រើ ឬ មិនបានប្រើក្តី សម្រាប់ការផលិតទំនិញ(ផលិតផល)អ្វីមួយ ក៏ដោយ ក៏គុណភាព (គឺថា វាក្លាយបន្តិចម្តងៗ ទៅជារបស់ចាស់ សឹករេចរិល...... ) ហើយ តំលៃរបស់វា នឹងត្រូវធ្លាក់ចុះបន្តិចម្តងៗ ទៅតាមនោះដែរៗ

(២) ចំណាយប្រែប្រួល គឺជាប្រភេទចំណាយជាក់ស្តែងសម្រាប់ការផលិតមុខផលិតផល ឬ សេវាកម្មអ្វីមួយ។ ការចំណាយប្រភេទនេះ រួមមាន វត្ថុធាតុដើម ដូចជា គ្រាប់ពូជ ជី ថ្នាំ កំបោរស ការរៀបចំដី ថ្លៃបូមទឹកស្រោចស្រព ពលកម្ម...... ដែលត្រូវការ ចាំបាច់សម្រាប់ផលិតរបស់ ឬ ផលិតផលអ្វីមួយ (ដូចជា បន្លែ ផ្សិតចំបើង ពោត សណ្តែក មាន់ ជ្រូក......) ។

ដើម្បីឲ្យដឹងច្បាស់ ថាតើគោលដៅជោគជ័យជំនួញ សម្រេចបានត្រឹមណានោះ គេត្រូវការព័ត៌មានជាចាំបាច់ ដែលមិនអាចរកបាន ក្រៅពីការកត់ត្រាជាប្រចាំ និង បានត្រឹមត្រូវរបស់យើង នោះឡើយ ។ ការកត់ត្រា អាចផ្តោតលើ ការប្រមូលព័ត៌មានចាំបាច់ សម្រាប់វិភាគចំណាយ និង ចំណេញ និង តម្រង់ទិសមុខរបរ ឬ ផលិតកម្ម តាមពេលវេលា ឲ្យចំឆ្លើយតបតាមតម្រូវការទីផ្សារ និង ទៅអនាគតខាងមុខ ។ ខាងក្រោមនេះ ជាទម្រង់កត់ត្រាគំរូសាមញ្ញមួយ ដែលកសិករ (*អ្នកដាំបន្លែ*) អាចប្រើសម្រាប់កត់ត្រាចំណាយ ចំណូលរបស់ខ្លួន ។

ក. តារាងចំណាយ

| ឈ្មោះផលិតកម្ម:............................................<br>ថ្ងៃចាប់ផ្តើមផលិតកម្ម:...................................... | | | ថ្ងៃបញ្ចប់ផលិតកម្ម:.......................... | | |
|---|---|---|---|---|---|
| **ល.រ** | **មុខចំណាយ** | **ឯកតា** | **ចំនួន** | **តំលៃ ១ឯកតា** | **ទឹកប្រាក់សរុប** |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |

ខ. តារាងចំណូល

| ឈ្មោះផលិតកម្ម:............................................<br>ថ្ងៃចាប់ផ្តើមផលិតកម្ម:...................................... | | | ថ្ងៃបញ្ចប់ផលិតកម្ម:.......................... | | |
|---|---|---|---|---|---|
| **ល.រ** | **មុខចំណូល** | **ឯកតា** | **ចំនួន** | **តំលៃ ១ឯកតា** | **ទឹកប្រាក់សរុប** |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |
| | | | | | |

## ៩.២. តារាងគំរូ សម្រាប់វិភាគចំណាយចំណូលផលិតកម្មដំណាំបន្លែ

| | |
|---|---|
| កសិករ: | នៅ: |
| ដំណាំ: *(ត្រសក់ទ្រើង)* | ពូជ: |
| ថ្ងៃចាប់ផ្តើម: | ថ្ងៃប្រមូលផល: |
| ផ្ទៃដី: (ម៉ែត្រការ៉េ) | ចំនួនដើម: |

| បរិយាយ | ឯកត្តា | ចំនួន ឯកត្តា | តម្លៃ ១ ឯកត្តា | ទឹកប្រាក់ សរុប | ចំនួនសារ រំលស់ | ប្រាក់សរុប ១ រដូវ (រៀល) |
|---|---|---|---|---|---|---|
| **១-ចំណូល** | | | | | | |
| ក-ប្រាក់ចំណូលដែលលក់បាន | គីឡូក្រាម | | | | | |
| ខ-មិនមែនជាប្រាក់ចំណូល(ហូប) | គីឡូក្រាម | | | | | |
| | ចំណូលសរុប | A | | | | |
| **២ក-ចំណាយប្រែប្រួល** | | | | | | |
| កម្លាំងពលកម្ម (សរុប ១វគ្គដាំដុះ) | ថ្ងៃ (ឬ ម៉ោង) | | | | | |
| គ្រាប់ពូជ | កញ្ចប់ | | | | | |
| ជីគីមី | សរុបរួម | | | | | |
| ជីធម្មជាតិ | គីឡូក្រាម | | | | | |
| ជីទឹកជំនួយលូតលាស់ | កញ្ចប់ | | | | | |
| ថ្នាំកំចាត់ជម្ងឺផ្សិត | សរុបរួម | | | | | |
| ថ្នាំកំចាត់សត្វល្អិត | សរុបរួម | | | | | |
| ម៉ាស៊ីនបូមទឹក | ប្រេងដែលប្រើ | | | | | |
| អន្ទាក់ចាប់សត្វល្អិត | ឈុត | | | | | |
| | សរុបចំណាយ ប្រែប្រួល (TVC) | | | | | |
| *៣ក-ចំណេញ ធៀប ចំណាយប្រែប្រួល* | | | | | | |
| **២ខ-ចំណាយមិនប្រែប្រួល/ថេរ (ត្រូវរំលស់)** | | | | | | |
| កៅស៊ូប្លាស្ទិចគ្របដីរង | ម៉ែត្រ | | | | | |
| បង្គោលចំណារ/ទ្រើង | ដើម | | | | | |
| ខ្សែទ្រើង | គីឡូក្រាម | | | | | |
| ថាសបណ្តុះកូន | ថាស | | | | | |
| សំណាញ់ទ្រើង | ដុំ | | | | | |
| | សរុបចំណាយមិនប្រែប្រួល ថេរ (TFC) | | | | | |
| **២គ-ចំណាយសរុប** (TC = TVC+TFC ) | | | | | | TC |
| *៣ខ-ចំណេញ ធៀប ចំណាយសរុប* (TC) | | | | | | B |
| | | | | | | |
| ថ្លៃដើម ១ គីឡូ (រៀល) | | | | | | = TC / A |
| ចំណេញ ១ គីឡូ (រៀល) | | | | | | = B / A |

